(Rule of Tajwīd VI & Sifaatul Huroof, Part I)

1.Makhaarij (Point of Articulation)
2.Sifaatul Huroof (صفات الحروف)
3.Tajweed

~តួរអក្សរអារ៉ាប់មួយមានយ៉ាងតិច 5 Sifaat Quality

~Sifaat ជាពហុវចនៈ និង Sifah ជាឯកវចនៈ

~Sifah គឺជាការសន្ទត់អំពីអ្វីមួយ ដូចជាការសន្ទត់ពណ៌ជាដើម

~Sifaatul Huroof គឺជាលក្ខណះសម្បត្តិនៃតួអក្សរ
(Characteristic, Attribute, Quality)

~Sifaatul Huroof គឺដើម្បីបញ្ជាក់ថាតួអក្សរមិនបាត់បង់ ក្នុងពេលសូត្រ ដូចជាតួអក្សរ ដែលចេញមកពី makhraj ដូចគ្នាតែសូត្រមានភាពខុសប្លែកគ្នា

Caption

~Sifaatul Huroof គឺជា Attribute of Quality (ការសន្ទត់អំពីគុណលក្ខណះ) របស់តួអក្សរដែលអក្សរណាមួយត្រូវអានមានលក្ខណះ ស្រាល ធ្ងន់...

~Sifaatul Huroof គឺជាវិធីមួយដើម្បីបង្ហាញអំពីតួអក្សរនៅពេលវាស្ថិតនៅចំនុច makhraj របស់វាដើម្បីញែកឲ្យ ឃើញភាពខុសគ្នារវាងតួអក្សរៗ (គឺជាវិធីញែកឲ្យឃើញភាពខុសគ្នារវាងតួអក្សរដែលមាន makhraj ដូចគ្នា)

~makhraj អាចប្រាប់យើងអំពីចំនុចសំលេងនៃតួអក្សរមកពីកន្លែងណាមួយដូចជា មាត់ បបូរមាត់ អណ្តាត ឬចុងអណ្តាតជាដើម ។

~makhraj គឺជាចំនុចដែលតួអក្សរអារ៉ាប់ ឬសំលេងបញ្ចេញមក

~makhraj ផ្តល់ឲ្យយើងដឹងអំពីកន្លែងដែលសំលេងតួអក្សរ ចេញមកប៉ុណ្ណោះ ខណះដែល Sifaat ផ្តល់បន្ថែមអំពី លក្ខណះរបស់តួអក្សរដើម្បីធ្វើឲ្យសំលេងបញ្ចេញមកបានត្រឹមត្រូវល្អ និងដើម្បីញែកឲ្យឃើញភាពខុសគ្នារវាងតួអក្សរដែលមាន makhraj ដូចគ្នា ហើយប្រាកដថាតួអក្សរ និមួយៗដើម្បីអានឲ្យបានត្រឹមត្រូវ ។

~ការសូត្រឲ្យបានល្អត្រឹមត្រូវលុះត្រាតែមានទាំង sifah (លក្ខណ:/គុណភាព) និង makhraj ត្រឹមត្រូវ ដូចនេះចាំបាច់ចងចាំ Sifaat របស់តួអក្សរ

~Sifaatul Huroof សំដៅទៅលើតួអក្សរផ្សេងគ្នាតែមាន makhraj ដូចគ្នា

~Sifaatul Huroof និងការអនុវត្តរបស់វា គឺជាផ្នែកដ៏សំខាន់របស់ Tajweed

Caption

~Sifaatul Huroof ការសិក្សាវាដើម្បី ៖

1.ដើម្បីអានតួអក្សរផ្សេងគ្នាដែលមាន makhraj ដូចគ្នាឲ្យបានត្រឹមត្រូវ (ការប្រាកដថាអក្សរនិមួយៗអានឲ្យបានត្រឹមត្រូវ)

2.ដើម្បីឲ្យយើងដឹងថាតួអក្សរមួយណាមានលក្ខណះ ខ្លាំង ឬខ្សោយ មួយណាមានឥទ្ធិពលខណះពេលដែលបញ្ចូល ទៅនឹងអក្សរផ្សេងទៀតទោះជាបញ្ចូលដោយពេញលក្ខណះ និងមិនពេញលក្ខណះក៏ដោយ

3.ដើម្បីញែកឲ្យឃើញភាពខុសគ្នារវាងតួអក្សរដែលមាន makhraj ដូចគ្នា

~Sifaatul Huroof មាន 2 ប្រភេទ និង

1. Sifaatul laazimah (al-thaatiyyah)
(صفات لازمة – الذاتية)

~Sifaatul laazimah (permanent characteristics) គឺជាលក្ខណះមួយដែលគេមិនអាចដកវាចេញបានដោយសារវាជាផ្នែកមួយនៃការបង្កើតតួអក្សរ
ឬ វាគឺជាសិទ្ធិមួយរបស់តួអក្សរ
~Sifaatul laazimah គឺជាលក្ខណះមួយដែតែងតែមាន នៅក្នុងតួអក្សររាល់ពាក្យទោះបីពួកវាមួយចំនួនបញ្ចេញយ៉ាង ច្បាស់នៅពេលអក្សរក្លាយជា Sukoon ដូចជា Qalqalah និង Hams Quality ជាដើម

2. Sifaatul ‘aaridah (al-zaa’idah)
(صفات العارضة – الزائدة)

~Sifaatul ‘aaridah (redundant/temporary characteristics)
Caption
គឺជាលក្ខណះដែល ’បន្ថែមទៅ’ ឬ ’បំពេញ’ តួអក្សរមួយ ។ ដូចជា ប្រសិនបើ Sifaatul ‘aaridah ដកចេញអំពីតួអក្សរ ណាមួយវានឹងមិនប៉ះពាល់ដល់តួអក្សរពិតប្រាកដនោះទេ ដូចនេះវាគឺជាសិទ្ធិបន្ថែមរបស់តួអក្សរ (additional right) ។
~Sifaatul ‘aaridah គឺជាលក្ខណះមួយវាគ្រាន់តែមាននៅ ពេលជាក់លាក់ណាមួយក្នុងហេតុផលមួយ ហើយវាបញ្ចប់ទៅវិញនៅពេលហេតុផលនោះមិនមាន ដូចជា Idgham Ikhfaa Madd Qalb...

©sifaatul laazimah

»sifaatul laazimah មាន 2 ប្រភេទ និងបែងចែកជា 17 ផ្នែក ៖

1.sifaatul mutadaaddah (صفات المتضادّة)

~មានន័យថា លក្ខណៈផ្ទុយគ្នា

~sifaat ដែលផ្ទុយគ្នាមានចំនួន 10 ឬ 5 គូរ

2.sifaat ghayr mutadaaddah (صفات غير متضادّة)

~មានន័យថា លក្ខណៈមិនផ្ទុយគ្នា

~sifaat ដែលមិនផ្ទុយគ្នាមានចំនួន 7

•sifaatul mutadaaddah

1.Al-Hams ≠ Al-Jahr
2.Ash-Shiddah ≠ Al-Rakhaawah & (middle) Al-tawasut
3.Al-Isti'laa' ≠ Al-Istifaal
4.Al-Itbaaq ≠ Al-Infitaah
5.Al-Ithlaaq ≠ Al-Ismaat

Caption

1. Al-Hams ( الهمس ) – whispering:

ت ث ح خ س ش ص ف ك هـ

~មានចំនួន 10 តួអក្សរ និងត្រូវបានគេហៅឈ្មោះថាអក្សរ مهمو سة (អក្សរដែលមាន Quality of Hams)

(ការបញ្ចូលគ្នាជាប្រយោគគឺ)

فَحَثَّهُ شَخْصٌ سَكَتْ

~Al-Hasms មានន័យថា Whispering Sound

~Al-Hams គឺត្រូវបន្តដង្ហើមនៅពេលបញ្ចេញតួអក្សរទាំងនេះ

~Al-Hams គឺជាតួរអក្សរខ្សោយដែលជាមូលហេតុធ្វើឲ្យខ្សោយក្នុងការបញ្ចេញ makhraj

~Al-Hasms មាន Whispering (ស្ងូវ) ផងដែរនៅពេលអក្សរមាន harakat (សញ្ញាវណ្ណយុត្តិ) ដែលផ្សេងអំពី sukoon (ـْـ)

~Al-Hams ផ្ទុយអំពី Al-Jahr

~Al-Hams មាន Vocal cords (បំពង់សម្លេង) មិនញ័រ

~Al-Hams Quality គឺខ្លាំងនៅពេលមាន sukoon (ـْـ)

~Al-Hams Quality នៅពេលដាក់ទៅលើតួអក្សរគឺ ដង្ហើមត្រូវបន្តនៅពេលបញ្ចេញសំលេង

Caption

~Al-Hams Quality គឺត្រូវបញ្ចេញសំលេងដោយ ៖

1.Vocal cords (បំពង់សម្លេង) មិនញ័រ

2.Air flow នៃខ្យល់ចាំបាច់បញ្ចេញមកក្រៅ និងបន្តដង្ហើម

~Al-Hams Quality បញ្ចេញសំលេងអាចខ្សោយក៏បានដោយសាធាតុដើមរបស់វាខ្សោយ ដូចជា អក្សរ ح ، (ex أَحْ)

~អក្សរ س តែងតែជា Strong Hams ទោះជា harakat អ្វីក៏ដោយ

~អក្សរ س នៅពេលមាន sukoon វាជា Hams ដោយស្វ័យប្រវត្តិ (basically apply)

~អក្សរ ك និង ت មិនគ្រាន់តែជា Hams នោះទេតែនៅ ពេលវាមាន sukoon វាមាន Ash-Shiddah Quality ទៀតផងដែរ

~តួអក្សរ (ك ت) នៅពេលសូត្រវាត្រូវបញ្ចូល Ash-Shiddah Quality មុនបន្ទាប់មក Hams Quality ចុងក្រោយ ដូចជា៖

(أَتْ أَكْ= 'អាក់ អាត់' ជា Ash-Shiddah Quality ។ និងបញ្ចេញសំលេងជា 'អាក់ក្ហឺ អាត់ត្ហឺ' ជា Hams Quality)

2. Al-Jahr ( الجهر ) – audibility:

~មានចំនួន 19 តួអក្សរ និងត្រូវបានគេហៅឈ្មោះថាអក្សរ مجهورة (អក្សរដែលមាន Quality of Jahr)

Caption

ا ب ج د ذ ر ز ض ط ظ ع غ ق ل م ن و ء ى

~Al-Jahr មានន័យថា to be apparent

~Al-Jahr គឺមិនបន្តដង្ហើមនៅពេលបញ្ចេញសំលេង ហើយសំលេងមិនបញ្ចេញមកក្រៅ

~Al-Jahr គឺបញ្ឈប់ Air flow នៃខ្យល់របស់ makhraj នៃតួអក្សរ

~Al-Jahr មាន Vocal cords (បំពង់សម្លេង) ញ័រ

~Al-Jahr Quality ពឹងផ្អែកយ៉ាងខ្លាំងទៅលើ makhraj របស់តួអក្សរទៅតាមធាតុខ្លាំងរបស់វា

~Al-Jahr Quality គឺត្រូវបញ្ចេញសំលេងដោយ៖

1.Vocal cords (បំពង់សម្លេង) ញ័រ

2.មិនបន្តដង្ហើម មិនបន្តសំលេង

3.មិនបន្ត Air flow នៃខ្យល់

3. a) Ash-Shiddah ( الشدة ) – strength/force:

~មានចំនួន 8 តួអក្សរ

~អក្សរដែលមាន Quality of Ash-Shiddah៖

أ ب ت ج د ط ق ك

(ការបញ្ចូលគ្នាជាប្រយោគគឺ)

أَجِدُ قَطٍ بَكَتْ

Caption

~Ash-Shiddah មានន័យថា strength

~Ash-Shiddah គឺមិនបន្តសំលេងដែលវាជាមូលហេតុធ្វើឲ្យមានការពឹងផ្អែកយ៉ាងខ្លាំងទៅលើ makhraj នៃតួអក្សរ

~Ash-Shiddah គឺសង្កត់នៅនឹងបំពង់ក

~Ash-Shiddah គឺសំលេងពីខាងក្រោមមកតែមិនចេញក្រៅ និងជាប់នៅក្នុងមាត់

~Ash-Shiddah ផ្ទុយនឹង Ar-Rakhaawah ហើយ At-Tawassut នៅចន្លោះទាំងពីរនេះ

~បើតួអក្សរមាន Ash-Shiddah Quality គឺមិនបន្តសំលេង

~Ash-Shiddah Quality បើយើងដាក់វាទៅលើអក្សរ ج នាំឲ្យសំលេងជាប់នៅនឹង (block) ពិតានមាត់រឹង

~តួអក្សរ (ك ت) នៅពេលសូត្រវាត្រូវបញ្ចូល Ash-Shiddah Quality មុនបន្ទាប់មក Hams Quality ជាចុងក្រោយ

(أَتْ أَكْ= 'អាក់ អាត់' ជា Ash-Shiddah Quality ។ និងបញ្ចេញសំលេងជា 'អាក់ក្ហឺ អាត់ត្ហឺ' ជា Hams Quality)

~Ash-Shiddah ដើម្បីដកចេញការសង្កត់ (Stress) នៃ Ash-Shiddah Quality ត្រូវ ៖

Caption

1.ដាក់បន្ថែម Qalqalah rule

2.ដាក់បន្ថែម Hams rule (ការបន្តដង្ហើម)

~Ash-Shiddah តួអក្សររបស់វាត្រូវបែងចែកជា 2 ៖

I.حرف الشديد المجهور

~Shiddah + Jahr មាន 6 តួអក្សរ (أ ب ج د ط ق)

قُطْبُ جَدٍّ + Hamzah

~ប្រភេទនេះ ៖ មិនបន្តសំលេង + មិនបន្តដង្ហើម

(គឺសំលេង Qalqalah rule ត្រូវបានគេបន្ថែម)

Ex: جْ أ មិនបន្តសំលេងគឺ សូត្រថា ’អាច់’ + មិនបន្តដង្ហើម ត្រូវសូត្របន្ថែមជា Qalqalah rule ទៀត ’ជឹ’

II.حرف الشديد المهموس

~Shiddah + Hams មាន 2 តួអក្សរ (ك ت)

~ប្រភេទនេះ ៖ មិនបន្តសំលេង + បន្តដង្ហើម

(គឺសំលេង Hams rule ត្រូវបានគេបន្ថែម)

Ex:
أكْ أتْ= ’អាក់ អាត់’ ជា Ash-Shiddah Quality ។ និងបញ្ចេញសំលេងជា ’អាក់ក្ហឺ អាត់ត្ហឺ’ ជា Hams Quality

Caption

3. b) At-Tawassut/Al-bayneeyah ( البينية ) – moderation :

~មានចំនួន 5 តួអក្សរ

~អក្សរដែលមាន Quality of At-Tawassut التو سط ៖

ن م ل ع ر

(ការបញ្ចូលគ្នាជាប្រយោគគឺ)

لِنْ عُمَرْ

~At-Tawassut មានន័យថា moderation

~At-Tawassut គឺនៅចន្លោះរវាង Ash-Shiddah (ខ្លាំង) និង Ar-Rakhaawah (ស្រាល)

~At-Tawassut គឺបន្តិចបន្ត និងបន្តិចមិនបន្ត

~At-Tawassut គ្មាន Quality ដោយខ្លួនឯងផ្ទាល់នោះទេ វាស្ថិតនៅចន្លោះខ្លាំង និង ស្រាល

~At-Tawassut Quality អាចដាក់ទៅលើតួអក្សរទាំង 5 នេះនៅពេលមាន Sukoon sign តែវាមិនអាចទៅលើ fatha dhamma និង kasrah sign បានទេ

~Ex: أَلْ

Caption

»makhraj សំលេងរបស់អក្សរ ل គឺនៅជាប់នឹងចុងអណ្តាតមិនអាចចេញមកក្រៅ
»នៅពេល At-Tawassut Quality បញ្ចូលទៅធ្វើឲ្យ សំលេងអាចចេញបានតាមសងខាងអណ្តាត ហើយ Vocal cord ញ័រ

Ex: أَنْ ، أَمْ

»សំលេងរបស់ពួកវាជាប់នៅក្នុងមាត់ ឬគល់អណ្តាត តែសំលេងអាចចេញក្រៅបានតាម Khysoom ផងដែរ

Ex: أَرْ

»សំលេងរបស់វាជាប់នៅក្នុងមាត់ តែសំលេងអាចចេញក្រៅ បានតាមរយៈចុងអណ្តាតធ្វើសំលេងក្រាស់ ឬសំលេងធ្ងន់

4. Ar-Rakhaawah ( الرخاوة ) – weakness:

~មានចំនួន 16 តួអក្សរ

~អក្សរដែលមាន Quality of Ar-Rakhaawah ៖

ث ح خ ذ ز س ش ص ض ظ غ ف و ه ء ى

~Ar-Rakhaawah មានន័យថា Softness

~Ar-Rakhaawah គឺបន្តសំលេង

~Ar-Rakhaawah គឺខ្សោយក្នុងការពឹងផ្អែកទៅលើ makhraj នៃតួអក្សរ ដោយសាការបន្តសំលេងនៃតួអក្សរ

~Ar-Rakhaawah មិនសង្កត់

~Ar-Rakhaawah ស្រដៀងនឹង Qalqalah

~Ar-Rakhaawah នៃ អក្សរ ش ៖

a.សូត្រមិនសង្កត់, សំលេងបន្ត, បន្តដង្ហើម

b.ដើម្បីឲ្យការអានបានងាយស្រួលត្រូវបន្ថែម Hams Quality ដោយទុកចន្លោះ (little space) រវាងអណ្តាតកណ្តាល និងពិតានមាត់ និងបញ្ចេញខ្យល់

5. Al-Isti’laa’ ( الاستعلاء ) – elevation:

~មានចំនួន 7 តួអក្សរ

~អក្សរដែលមាន Quality of Al-Isti’laa’ ត្រូវបានគេហៅថា مُفَخَّمةٌ دائِما ៖

خ ص ض ط ظ غ ق

(ការបញ្ចូលគ្នាជាប្រយោគគឺ)

خُصَّ ضَغْطٍ قِظْ



~Al-Isti’laa’ មានន័យថា elevation (អ្វីមួយដែលខ្ពស់)

~Al-Isti’laa គឺសំលេងរបស់វាឡើងទៅលើ

~Al-Isti’laa’ គឺការបង្កើតសំលេងធ្ងន់

Caption

~Al-Isti’laa’ គឺសំលេងដែលឡើងទៅលើដោយចេញពី អណ្តាត ហើយនៅតំបន់ក្នុងមាត់

~Al-Isti’laa’ សំលេងធ្ងន់ តែមិនមែនធ្ងន់ខ្លាំង (Extra Bold) ដូចជា Al-Itbaaq

~Al-Isti’laa’ នៅពេលធ្វើសំលេងរបស់វាអណ្តាតក្រោយត្រូវឡើងទៅលើក្រអូមមាត់ (តែមិនមែនគ្រប់ពេល)

~Al-Isti’laa’ មិនត្រឹមតែអណ្តាតក្រោយឡើងទៅលើនោះទេ គឺសំលេងត្រូវឡើងទៅលើទើបវាជាមូលហេតុ ចំបងរបស់វាដែលនាំឲ្យមានសំលេងធ្ងន់

~Al-Isti’laa ផ្ទុយពី Al-Istifaal

~តួអក្សរ 7 នេះគឺ مُفَخَّمةٌ دائِما (តែងតែអានជាសំលេងធ្ងន់)

~តួអក្សរ 7 នេះត្រូវបែងចែកជា 2 ៖

a.مستعلية مُطبَقة ដែលមាន 4 អក្សរ ៖ ص ض ط ظ

b.مستعليةٌ مُنفتِحة ដែលមាន 3 អក្សរ ៖ ق خ غ

6. Al-Istifaal ( الاستفال ) – lowness:

~មានចំនួន 22 តួអក្សរ

~អក្សរដែលមាន Quality of Al-Isti’laa’ ៖

ا ب ت ث ج ح د ذ ر ز س ش ع ف گ ل م ن و ه ء ی

Caption

~Al-Istifaal មានន័យថា lowering/dropping

~Al-Istifaal គឺសំលេងត្រូវចុះទៅក្រោម

~Al-Istifaal គឺរក្សាអណ្តាតទាប (រក្សាសំលេងចុះក្រោម)

~Al-Istifaal មិនមែនសំដៅលើការរក្សាអណ្តាតចុះទាបនោះទេ

~Al-Istifaal រក្សាអណ្តាតចុះទាប មានន័យថា ត្រូវរក្សា សំលេងចុះចាប់ពីពិតានមាត់រឹង

~Al-Istifaal គេអាចហៅវាថាសំលេងស្រាល

~តួអក្សរ 22 នេះគឺ مُرَقَّقَةٌ دائِما (តែងតែអានជាសំលេងស្រាល)

~Al-Istifaal មាន 3 អក្សរជួនកាលអានជាសំលេងស្រាល និងជួនកាលអានជាសំលេងធ្ងន់ដែលគេហៅថា
تُفَخَّمُ اَحْيانا មានតួអក្សរដូចជា (ا، ل، ر)

©Alif Laam Raa (Bold/Light Sound) Rule

~Alif ស្រាលមានសូរ ’អឺ, អា’

~Alif ធ្ងន់មានសូរ ’អ’

~Alif ធ្ងន់ធ្វើឲ្យតួអក្សរពីមុនវាធ្ងន់ផងដែរ

Caption

~Alif ធ្ងន់ គឺអណ្ដាតក្រោយលើកឡើងលើបន្តិចដោយសា ការបញ្ចេញសំលេងធ្ងន់

~Alif ស្រាល គឺអណ្ដាតធម្មតា ដូចនេះអណ្ដាតក្រោយមិនលើកឡើងលើទេ

~Alif ធ្ងន់ដោយសា ៖

1.Alif នៅបន្ទាប់ពីតួអក្សរ Al-Isti’laa

2.ដោយសាអក្សរ ل ៖ អក្សរ ل ដែលជាឈ្មោះអល់ឡោះ បើមានពីមុនឈ្មោះអល់ឡោះជា fatha ឬ dhamma ធ្វើឲ្យការអានឈ្មោះអល់ឡោះធ្ងន់ ឬការអានអក្សរ ل ធ្ងន់ដែល នាំឲ្យ Alif ធ្ងន់ផងដែរ (الحمدُ للّٰهِ)

3.ដោយសារអក្សរ ر ធ្ងន់ ៖ អក្សរ ر ធ្ងន់នៅពេលវា fatha ដែលធ្វើឲ្យ Alif បន្ទាប់ពីវាធ្ងន់ដែរ

~Alif ស្រាលដោយសារ ៖

1.Alif នៅបន្ទាប់ពីតួអក្សរ Al-Istifaal (ឬនៅបន្ទាប់ពីតួអក្សរដែលស្រាល)

2.ដោយសារអក្សរ ل ៖ អក្សរ ل ដែលជាឈ្មោះអល់ឡោះ បើមានពីមុនឈ្មោះអល់ឡោះជា kasrah ធ្វើឲ្យការអានឈ្មោះអល់ឡោះស្រាល ឬអក្សរ ل ស្រាលដែលនាំឲ្យ Alif ស្រាលផងដែរ(بِسمِ اللّٰه)

~Laam ធ្ងន់ ដោយសារអក្សរ ل ជាឈ្មោះអល់ឡោះដែលពីមុនវាជា fatha ឬ dhamma និងមានសូរ ’អ’

~Laam ស្រាល ដោយសារអក្សរ ل ជាឈ្មោះអល់ឡោះដែលពីមុនវាជា kasrah និងមានសូរ ’អី’

Caption

~Raa មាន 8 លក្ខណៈធ្ងន់ 4 លក្ខណៈស្រាល និង 2 លក្ខណៈអាចអានជាធ្ងន់ ឬស្រាលក៏បាន

~Raa ធ្ងន់មាន 8 លក្ខណៈ ៖

1.Raa មាន fatha sign

2.Raa មាន sukoon sign ហើយមាន fatha ពីមុនវា

3.Raa មាន sukoon sign ហើយពីមុន Raa មាន sukoon នេះមាន sukoon sign ហើយពីមុន sukoon នេះទៀតមាន fatha (العَصْرُ) (3 កន្លែង)

4.Raa មាន dhamma sign

5.Raa មាន sukoon sign ហើយមាន dhamma ពីមុនវា

6.Raa មាន sukoon sign ហើយពីមុន Raa មាន sukoon នេះមាន sukoon sign ហើយពីមុន sukoon នេះទៀតមាន dhamma (خُسْرٌ) (3 កន្លែង)

7.Raa មាន sukoon sign ហើយមាន Temporary kasrah (كسرةٌ عارضةٌ) ពីមុនវា (اُرجِعوا)

(Alif នៅត្រង់ចំណុចនេះគឺ kasrah យោងទៅតាម Arabic Grammar)

8.Raa មាន sukoon sign ហើយមាន kasrah ពីមុនវា ហើយនៅឯបន្ទាប់ពី Raa មាន

Caption

sukoon វិញមានតួអក្សរ

Al-Isti'laa' ដែលមិនមាន kasrah (فِرْقَةٍ) (3 កន្លែង)

~Raa ស្រាលមាន 4 លក្ខណះ ៖

1.Raa មាន kasrah sign

2.Raa មាន sukoon sign ហើយពីមុន Raa មាន sukoon នេះមាន kasrah أصليَّة (ជា kasrah ដែលមាននៅលើតួអក្សរតែម្តង) ហើយអក្សរនៅឯបន្ទាប់ពី Raa មាន sukoon វិញមិនមែនជាតួអក្សរ Al-Isti'laa' (فِرْعَوْن) (3 កន្លែង)

3.Raa មាន sukoon sign ហើយពីមុន Raa មាន sukoon នេះមាន sukoon ដែលមិនមែនជាតួអក្សរ Al-Isti'laa' ហើយពីមុន sukoon នេះទៀតមាន kasrah (حِجْرْ) (3 កន្លែង)

4.Raa មាន sukoon sign ហើយពីមុន Raa មាន sukoon នេះមាន Yaa Leen (ي ដែលមាន sukoon sign ហើយមាន fatha ពីមុនវា) (خَيْرْ)  (3 កន្លែង)

(Yaa ដែលមាន sukoon sign ហើយបន្ទាប់ពីវា Raa មាន sukoon sign ដូចនេះ Raa ជំនួសកន្លែង Yaa វិញ)

~Raa ធ្ងន់/ស្រាល មាន 2 លក្ខណះ ៖

1.Raa មាន sukoon sign ហើយពីមុន Raa មាន sukoon នេះមាន kasrah ហើយនៅឯបន្ទាប់ពី Raa មាន sukoon វិញមានតួអក្សរ Al-Isti'laa' ដែលមាន kasrah sign (فِرْقٍ كَالطَّوْدِ) (3 កន្លែង)

Caption

»នេះជាជំរើសអាចសូត្រ Raa ធ្ងន់/ស្រាល ក៏បាននៅពេល ឈប់ត្រឹម Raa

»បើសូត្រឈប់នៅត្រង់តួអក្សរ Al-Isti'laa' វិញមានន័យថាអក្សរ ق នេះមាន sukoon sign ដែលធ្វើឲ្យ Raa ចាំបាច់អានធ្ងន់ដូចក្នុងលក្ខណះទី 8 នៃ Raa ធ្ងន់ ។

2.Raa មាន sukoon sign ហើយពីមុនវាជា តួអក្សរ Al-Isti'laa' ដែលមាន sukoon sign ហើយពីមុនតួអក្សរ Al-Isti'laa' នេះមាន kasrah ដូចនេះបើសូត្រវាឈប់នាំឲ្យ Raa មាន sukoon sign (Raa នេះដើមវាមាន kasrah sign) (الْقِطْرِ) (مِصْرَ) (3 កន្លែង)

»នេះជាជំរើសអាចសូត្រ Raa ធ្ងន់/ស្រាល ក៏បាននៅពេល ឈប់ត្រឹម Raa

»យោងទៅតាម Imam Ibn Jazari គាត់សូត្រ Raa ធ្ងន់ចំពោះ Raa ដើមដែលមាន fatha នៅពេលដែលឈប់ត្រឹម Raa និង Raa ស្រាល ចំពោះ Raa ដើមដែលមាន kasrah នៅពេលដែលឈប់ត្រឹម Raa ។ គាត់យក Raa មាន fatha ធ្វើជាធ្ងន់ និង Raa មាន kasrah ធ្វើជាស្រាល ។



Caption